ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

ឆ្នាំគម្រប់ពីរ

ខ្សែ ៨




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវីរណើម៉ង្គ

គ្រិ. ឆ្នាំ ១៩២៨

ព. ស. ២៤៧១

អ្នកទទួលខុសត្រូវ ជុំ-មៅ

# បញ្ជីរឿង

# អំពីផ្ចិតនិងគ្រែធម្មាសនៈដែលមានរចនា
# ជារូបខាងព្រាហ្មណសាសនា និងខាងពុទ្ធសាសនា

ក្នុងជំនុំផ្ចិតទាំងប៉ុន្មាន ដែលមានក្នុងព្រះរាជបណ្ណាល័យនោះ មានផ្ចិត ១ បានមកពីខេត្តកំពង់ចាម ជាផ្ចិតដែលមានប្រយោជន៍ដោយឡែកផ្សេង ផ្ចិតនោះប្រហែលជាធ្វើជាង ៩០ ឆ្នាំហើយ ដងធ្វើពីឈើខ្មៅប្រដាប់ដោយភ្លុកនៅចុងទាំងសងខាង តួផ្ចិតធ្វើពីសំពត់សាក្លាតពណ៌ក្រហមរាងដូចស្លឹកពោធិ៍ ហើយមានបន្តុបកំពូលស្រួចធ្វើដោយភ្លុក ផ្ចិតនោះមានកម្ពស់ចំនួន ៧៨ សង់ទីម៉ែត្រ ទទឹងចំនួន ៤៨ សង់ទីម៉ែត្រ មុខនៃផ្ចិតនោះប៉ាក់ដោយខ្សែសយទាំងអស់ មានពណ៌លឿងក្រហម ខៀវ បៃតង តែពណ៌ទាំងនេះហើយស្ទើរតែអស់ដោយ អំណាចពេលវេលាដែលកន្លងមកយូរហើយ ឃើញមានទាំងកញ្ចក់ភ្លែក មាន់ដាំរំលេចឲ្យផ្ទុះក្បាច់នោះឡើងផង នៅជាកណ្ដាលខ្សែបន្ទាត់ជុំវិញគេរចនាជារូបព្រះនារាយណ៍ដៃបួនឈរលើដៃគ្រុឌដែលទ្រពីក្រោម ដៃគ្រុឌនោះឃើញចាប់កន្ទុយនាគ ១ ម្ខាងផង ហើយដើងក្រញាំកនាគ ១ ម្ខាងដែរ គឺជាបែបរចនាដែលបុរាណខ្មែរតែងប្រើជាញឹកញយសម្រាប់លំអនៅហោជាង និងខ្លោងទ្វារនៃប្រា-សាទនានា ឯរឿងក៏របស់ព្រាហ្មណ៍ ដែលកាលពីដើមគេកប់អានណាស់ក្នុងស្រុកខ្មែរ ធ្វើឲ្យយើងបានដឹងថាគ្រុឌនោះជាពាហនៈ គឺជាជំនិះនៃព្រះនារាយណ៍ តាមជាតកបាលីយើងបានដឹងថា រឿងចាស់របស់

ព្រាហ្មណ៍ អំពីសេចក្តីគំនុំគ្នានៃគ្រុឌនិងនាគនោះបានស្រូបចូលមកជា មួយនឹងរឿងរ៉ាវខាងពុទ្ធសាសនា សេចក្តីនេះហើយជាការនាំឲ្យយល់ច្បាស់ថាហេតុដូចម្តេចបានជាជាងខ្មែរបុរាណតែងតែរចនារូបគ្រុឌនិងនាគប្រយុទ្ធគ្នា ហើយហេតុដូចម្តេចបានជានៅមានរាប់អានត ៗ មកដរាបដល់សព្វថ្ងៃនេះ ។

យើងនៅមានភស្តុតាងម្យ៉ាងទៀត ក្នុងព្រះរាជបណ្ណាល័យ គឺគ្រែធម្មាសនៈដែលលោកគ្រូចៅអធិការវត្តសុរកី ក្នុងខេត្តកំពង់ស្ពឺបាននាំមក ។

គ្រែនោះធ្វើពីឈើខ្នុកម្រាក់ខ្មៅនឹងលាបទឹកមាស មានដាំកញ្ចក់ជាច្រើនពណ៌ ឯរូបថតដែលយើងថតដាក់ក្នុងទំនេះ គឺមើលឃើញចំពីខាងក្រោយ តួនៃគ្រែនោះរាងជាសត្វអណ្តើកហើយអណ្តើកនេះ តាមរឿងរ៉ាវរបស់ព្រាហ្មណ៍ថាជាជាតិរបស់ព្រះនារាយណ៍ដែរ ទីបផ្អែកនៃគ្រែនោះគេរចនាជារូបគ្រុឌនិងនាគតយុទ្ធគ្នា ជាងដែលធ្វើគ្រែនេះប្រកបការរចនាយ៉ាងសំខាន់ណាស់ គេធ្វើប្រហែលក្នុងរវាង ៦០ ឆ្នាំហើយហើយ គេបានផ្ចិតផ្ចង់ធ្វើដោយអស់ពីចិត្ត ។



# អភិធម្មវិភាគ

ព្រះញាណបវរវិជ្ជា ឯម ចាន់ ហ្វាន់ សាលាបរិយត្តិជាន់ខ្ពស់

រៀបរៀង



## អភិធម្ម វ័ណ្ណទាំង ៧

១ ធម្មសង្គណិ ១៣០០ ធម្មក្ខន្ធ ២២ ភាណវារ ៥៥០០ គន្ថ ១ សែន ៧ ម៉ឺន ៦ ពាន់អក្ខរ ព្រះអង្គសម្ដែង ១២ ថ្ងៃចប់ ទេវតាសម្រេចៗ កោដិ ។

២. វិភង្គ ៦៥០០ ធម្មក្ខន្ធ ៣៤ ភាណវារ ៨៥០០ គន្ថ ២ សែន ៧ ម៉ឺន ២ ពាន់អក្ខរ ព្រះអង្គសម្ដែង ១២ ថ្ងៃចប់ ទេវតាសម្រេច ៧ កោដិ ។

៣- ធាតុកថា ៧០០០ ធម្មក្ខន្ធ ១១ ភាណវារ ២៧៥០ គន្ថ ៨ ម៉ឺន ៨ ពាន់អក្ខរ ព្រះអង្គសម្ដែង ៦ ថ្ងៃចប់ ទេវតាសម្រេច ៦ កោដិ ។

៤- បុគ្គលបញ្ញត្តិ ៥៦០០ ធម្មក្ខន្ធ ១១ ភាណវារ ២៧៤០ គន្ថ ៨ ម៉ឺន ៨ ពាន់ អក្ខរ ព្រះអង្គសម្ដែង ៧ ថ្ងៃចប់ ទេវតាសម្រេច ៦ កោដិ ។

៥- កថាវត្ថុ ៧១០០ ធម្មក្ខន្ធ ៣៤ ភាណវារ ៨៥០០ គន្ថ ២

សែន ៧ ម៉ឺន ២ ពាន់អក្ខរ ព្រះអង្គសម្តែង ១២ ថ្ងៃចប់ ទេវតាសម្រេច ៧ កោដិ ។

៦- យមក ៥១០០ ធម្មក្ខន្ធ ១៦០ ភាណវារ ៣០០០០ គន្ថ ៩ សែន ៦ ម៉ឺន អក្ខរ ព្រះអង្គសម្តែង ១៨ ថ្ងៃចប់ ទេវតាសម្រេច ៧ កោដិ ។

៧- មហាបដ្ឋាន ៩៤០០ ធម្មក្ខន្ធ ១៨២ ភាណវារ ៤៥៥០០ គន្ថ ១ លាន ៩ សែន ៥ ម៉ឺន ៦ ពាន់អក្ខរ ព្រះអង្គសម្តែង ២៣ ថ្ងៃចប់ ទេវតាសម្រេច ៤០ កោដិ ។

រួមតាំងអស់ ៤ ម៉ឺន ២ ពាន់ធម្មក្ខន្ធ ៤១៤ ភាណវារ ១ សែន ៣ ពាន់ ៥០០ គន្ថ ៣ លាន ៣ សែន ១ ម៉ឺន ២០០១ អក្ខរ ៩០ ថ្ងៃចប់ ទេវតាសម្រេច ៨០ កោដិគត ( ៨ អក្ខរហៅថា ១ បាទ ៤ បាទហៅថា ១ គាថា,ក្នុងគាថា ១ ឈ្មោះថាគន្ថ, ១.២៥០ គន្ថហៅថា ភាណវារ ១)។

## សំខ្យាបករណ

### អភិធម្ម

ធម៌ដ៏ក្រៃលែងវិសេស ឈ្មោះថា អភិធម្ម ៗ នោះសម្តែងដោយបករណមាន ៧ គឺ ៖

១- បករណដែលសម្តែងរួបរួមនូវកងធម៌ដ៏ល្អិតហៅថា ធម្មសង្គណិ ។

២- បករណ៍ដែលសម្តែងញែក បំបែកនូវធម៌ផ្សេង ៗ ហៅថាវិភង្គ ។

៣- បករណ៍ដែលសម្តែងនូវកថាសង្គ្រោះនូវធាតុ ហៅថាធាតុកថា ។

៤- បករណ៍ដែលសម្តែងនូវសេចក្តីបញ្ញត្តិនៃបុគ្គល ហៅថា បុគ្គលបញ្ញត្តិ ។

៥-បករណ៍ដែលសម្តែងនូវវត្ថុ ជាទីតាំងនៃ កថា ហៅថា កថាវត្ថុ ។

៦- បករណ៍ដែលសម្តែងនូវធម៌ជាគូ ៗ ហៅថា យមក ។

៧- បករណ៍ដែលសម្តែងនូវហេតុជាទីតាំងដ៏ធំ ៗ ហៅថា មហាបដ្ឋាន ។

១- បករណ៍ដែលសម្តែងរួបរួមនូវគន្ធធម៌ដ៏ល្អិតនោះ ញែកបែកជាបរិច្ឆេទ ១៤ មានកុសលបរិច្ឆេទជាដើម មានវិជ្ជាភាគបរិច្ឆេទជាទីបំផុតខាងចុង ។

## ញែកបែកចេញជាមាតិកាមាន ៣ គឺ

១. តិក្កមាតិកា ២២ មានកុសលតិក្កមាតិកាជាដើម មានសនិទស្សនតិក្កមាតិកាជាទីបំផុតខាងចុង ។

២. ទុក្កមាតិកា ក្នុងអភិធម្មភាជនីយ ១០០ មានហេតុទុក្កមាតិកាជាដើម មានបិដ្ឋិទុក្កមាតិកាជាទីបំផុតខាងចុង ។

៣- សុត្តន្តិកទុក្កមាតិកា ៤២ មានវិជ្ជាភាគទុក្កមាតិកាជាដើម មានខយេញាណទុក្កមាតិកាជាទីបំផុតខាងចុង ។

## ១- កុសលបរិច្ឆេទ តិកមាតិកា ២២

## កុសលតិក ៣

១- សភាវធាតុទាំងឡាយឯណាទ្រទ្រង់នូវសភាពនៃខ្លួន សភាវនោះហៅធម៌ សភាវទាំងឡាយសម្រាប់កំចាត់បង់នូវសេចក្ដីអាក្រក់ គឺបណ្ឌិតគប្បីធ្វើម ហៅថាកុសលធម៌ គឺធ្វើសត្វឲ្យបានសេចក្ដីសុខ ។

២- សភាវទាំងឡាយ មិនកំចាត់បង់នូវសេចក្ដីអាក្រក់ គឺបណ្ឌិតគប្បីធ្វើម ហៅថាអកុសលធម៌ គឺធ្វើសត្វឲ្យបានសេចក្ដីទុក្ខ ។

៣- សភាវធម៌ទាំងឡាយ គឺព្រះសម្មាសម្ពុទ្ធមិនសំដែងថាជាកុសល ថាជាអកុសលឲ្យដាច់ខាត ហៅថាអព្យាក្រិត្យ ។

## ២- សុខតិក ៣

១- សភាវធម៌ទាំងឡាយ ប្រកបដោយប្រការស្មើ តាមសេចក្ដីសោយនូវរសនៃអារម្មណ៍ជាសុខ ។

២- សភាវធម៌ទាំងឡាយ ប្រកបហើយដោយប្រការស្មើ តាមសេចក្ដីសោយនូវរសនៃអារម្មណ៍ជាទុក្ខ ។

៣- សភាវធម៌ទាំងឡាយ ប្រកបហើយដោយប្រការស្មើ តាមសេចក្ដីសោយនូវរសនៃអារម្មណ៍ មិនជាទុក្ខមិនជាសុខ ។

## ៣- វិបាកតិក ៣

១- ធម៌ទាំងឡាយ ជាផលនៃកុសល និងអកុសលទាំងឡាយ ដ៏

កស្រ័យហើយនូវគ្នានិងគ្នា ឈ្មោះវប្បធម៌ ។

២- ធម៌ទាំងឡាយ មានផលកើតអំពីផលនៃកុសល និងអកុសល ដ៏អាស្រ័យហើយនូវគ្នានិងគ្នាជាប្រក្រតី គឺ ជាតិធម៌ ជរាធម៌ ។

៣- ធម៌ទាំងឡាយមិនមានផល កើតអំពីផល នៃកុសលនិងអកុ-សលដ៏អាស្រ័យនូវនឹងគ្នាជាប្រក្រតីមែនពិត ។

## ៤- ឧបាទិណ្ណុបាទានិយត្តិក ៣

១- ធម៌ទាំងឡាយគឺកិលេសទាំងឡាយមានតណ្ហាជាដើម កាន់យកហើយដោយកម្ម បៀតបៀនហើយដោយកិរិយាធ្វើឲ្យជាអារម្មណ៍ និងចូលទៅជិតកាន់អារម្មណ៍ភាព ជាប្រយោជន៍ដល់ឧបាទាន ដោយកិរិយាចងក្រងជាប់នូវឧបាទាន ឈ្មោះវត្ថុបង្កើតជាអារម្មណ៍ បច្ច័យនៃឧបាទាន ។

២- ធម៌ទាំងឡាយគឺកិលេសទាំងឡាយ មានតណ្ហាជាដើម កាន់យកហើយដោយកម្ម មិនបានបៀតបៀនហើយដោយកិរិយាធ្វើឲ្យជាអា-រម្មណ៍ នឹងចូលទៅជិតកាន់អារម្មណ៍ភាព ជាប្រយោជន៍ដល់ឧបាទាន ដោយកិរិយាចងក្រងជាប់នូវឧបាទានឈ្មោះរូបារូបធម៌ ។

៣- ធម៌ទាំងឡាយគឺកិលេសទាំងឡាយមានតណ្ហាជាដើមកាន់យកហើយដោយកម្មមិនបានបៀតបៀន ហើយដោយកិរិយាធ្វើឲ្យជាអារម្មណ៍ និងមិនបានចូលទៅជិតកាន់អារម្មណ៍ភាព ជាប្រយោជន៍ដល់ឧបាទាន ដោយកិរិយាចងក្រងជាប់នូវឧបាទាន ។

## ៥- សំកិលិដ្ឋសំកិលេសិកតិក្ក ៣

១- ធម៌ទាំងឡាយ គួរសេចក្តីសៅហ្មង ព្រោះកិរិយាធ្វើនូវខ្លួនឲ្យជាអារម្មណ៍ ហើយប្រព្រឹត្តទៅ ប្រកបហើយក្នុងសេចក្តីសៅហ្មង ព្រោះកិរិយាមិនបានប្រព្រឹត្ត កន្លងនូវអារម្មណ៍នៃខ្លួននោះ ។

២- ធម៌ទាំងឡាយ មិនគួរនូវសេចក្តីសៅហ្មង ព្រោះកិរិយាធ្វើនូវខ្លួនឲ្យជាអារម្មណ៍ ហើយប្រព្រឹត្តទៅនោះ តែប្រកបហើយក្នុងសេចក្តីសៅហ្មង ព្រោះមិនបានប្រព្រឹត្តកន្លងនូវអារម្មណ៍ភាពនៃខ្លួន ។

៣- ធម៌ទាំងឡាយ មិនគួរនូវសេចក្តីសៅហ្មង មិនប្រកបហើយក្នុងសេចក្តីសៅហ្មង ។

## ៦- វិតក្កតិក្ក ៣

ធម៌ទាំងឡាយ ប្រព្រឹត្តទៅមួយអន្លើដោយវិតក្កផង ប្រព្រឹត្តទៅមួយអន្លើដោយវិចារផង ។

២- ធម៌ទាំងឡាយ មិនបានប្រព្រឹត្តទៅមួយអន្លើដោយវិតក្ក គ្រាន់តែមានវិចារមានប្រមាណតិចប៉ុណ្ណោះ ។

៣- ធម៌ទាំងឡាយ មិនមានវិតក្ក មិនមានវិចារ ។

## ៧- បីតិតិក្ក ៣

១- ធម៌ទាំងឡាយ ដល់ហើយនូវភាវៈបង្កើតឡើងជាមួយគ្នា មួយអន្លើដោយបីតិ ។

២- ធម៌ទាំងឡាយ ដល់ហើយនូវការៈបង្កើតឡើង ជាមួយគ្នាមួយអន្លើដោយសេចក្ដីសុខ ។

៣- ធម៌ទាំងឡាយ ដល់ហើយនូវការៈបង្កើតជាមួយគ្នា មួយអន្លើដោយឧបេក្ខាវេទនា ។

## ៨- ទស្សនត្តិក ៣

១ -ធម៌ទាំងឡាយ គឺបុគ្គលគប្បីលះបង់ដោយទស្សនញ្ញាណ ។

២- ធម៌ទាំងឡាយ គឺបុគ្គលគប្បីលះបង់ដោយមគ្គភាវនា ។

៣- ធម៌ទាំងឡាយ គឺបុគ្គលមិនគប្បីលះបង់ដោយទស្សនញ្ញាណមែនពិត គឺបុគ្គលមិនគប្បីលះបង់ដោយមគ្គភាវនា ។

## ៩- ត ទ ន ត្ថ រ ត្តិក ៣

១- ធម៌ទាំងឡាយ មានហេតុគួរគឺបុគ្គលគប្បីលះបង់ ដោយទស្សនញ្ញាណ ។

២- ធម៌ទាំងឡាយ មានហេតុគួរ គឺបុគ្គលគប្បីលះបង់ដោយមគ្គភាវនា ។

៣- ធម៌ទាំងឡាយ មានហេតុមិនគួរគេគប្បីលះបង់ដោយទស្សនញ្ញាណមែនពិត មិនគួរគេគប្បីលះបង់ដោយមគ្គភាវនា ។

## ១០- អាចយគាមិត្តិក ៣

១- ធម៌ទាំងឡាយ ញ៉ាំងបុគ្គលឲ្យត្រាច់ទៅកាន់សភាព គឺកម្មកិលេស

ទាំងឡាយសន្សំទុក (គឺ ចុតិ បដិសន្ធិ គតិ) ។

២- ធម៌ទាំងឡាយ ញុំាងបុគ្គលឲ្យដល់នូវព្រះនិព្វានព្រោះជាធម៌ប្រាសចេញចាកសភាពគឺកម្មកិលេសសន្សំទុក ។

៣- ធម៌ទាំងឡាយ មិនបានញុំាងបុគ្គលឲ្យគ្រាច់ទៅកាន់សភាពគឺកម្មកិលេសសន្សំទុកមែនពិត មិនបានញុំាងបុគ្គលឲ្យដល់នូវព្រះនិព្វានព្រោះជាធម៌ប្រាសចេញចាកកិរិយាសន្សំទុក ។

## ១១- សេក្ខតិក្ក ៣

១- ធម៌ទាំងឡាយ ត្រូវសិក្សាដោយខ្លួនឯងព្រោះការៈសិក្សាមានទីបំផុតមិនមាន ។

២- ធម៌ទាំងឡាយ មិនត្រូវសិក្សាដោយខ្លួនឯង ព្រោះមិនមានធម៌ដែលខ្លួនគប្បីសិក្សាតទៅទៀត ។

៣- ធម៌ទាំងឡាយ មិនត្រូវសិក្សាដោយខ្លួនឯងមែនពិតមិនមែនជាមិនត្រូវសិក្សាតទៅទៀត (គឺមានសិក្សាតទៅ ។

## ១២-បរិត្តតិក្ក ៣

១- ធម៌ទាំងឡាយបីដូចជាមានប្រមាណតិច ព្រោះការៈសោយតិច។

២-ធម៌ទាំងឡាយ ដល់ហើយនូវការៈធំ ព្រោះការៈមានផលដ៏ទូលាយអាចសង្កត់សង្កិននូវកិលេសបាន ។

៣- ធម៌ទាំងឡាយ មានប្រមាណមិនមាន ជាបដិបក្ខដល់ប្រមាណ ។

## ១៣- បរិត្តារម្មណត្តិក ៣

១- ធម៌ទាំងឡាយ មានអារម្មណ៍ប្រមាណតិច ។

២- ធម៌ទាំងឡាយ មានអារម្មណ៍ដល់ហើយនូវការ ច្រើនឬធំ ។

៣- ធម៌ទាំងឡាយ មានអារម្មណ៍មានប្រមាណមិនមាន ។

## ១៤- ហីនត្តិក ៣

១- ធម៌ទាំងឡាយ ដ៏ថោកថយលាមក (សំរាប់នាំសត្វទៅកាន់ទុក្ខ ។

២- ធម៌ទាំងឡាយ បង្កើតក្នុងទីកណ្តាលនៃហីនធម្មបណីតធម្ម ។

៣- ធម្មទាំងឡាយ ដ៏ឧត្តមគឺលោកុត្តរធម៌ (នាំសត្វទៅនិព្វាន) ។

## ១៥- មិច្ឆត្តត្តិក ៣

១- ធម៌ទាំងឡាយ មានសភាពខុសព្រោះប្រព្រឹត្តទៅ ដ៏វិបរិតផ្សេង ១ ផង ដ៏ទៀងផង ។

២- ធម៌ទាំងឡាយមានសភាពប្រពៃប្រាសចាកសេចក្តីវិបរិតផ្សេង ១ ផង ដ៏ទៀងដោយកិរិយាឲ្យនូវផលក្នុងលំដាប់ ១ ពិតមែន ។

៣- ធម៌ទាំងឡាយ មានសភាពមិនទៀង ដោយសភាពទាំងពីរ ។

## ១៦- មគ្គារម្មណត្តិក ៣

១- ធម៌ទាំងឡាយ មានមគ្គជាអារម្មណ៍ ។

២- ធម៌ទាំងឡាយ មានមគ្គប្រកបដោយអង្គ៨ជាហេតុដោយអត្ថថាជាបច្ច័យ ។

៣- ធម៌ទាំងឡាយ មានមគ្គជាអធិបតីដោយអត្ថថាកិរិយាគ្របសង្កត់នូវកងកិលេសហើយប្រព្រឹត្តទៅ ។

## ១៧-ឧប្បន្នត្តិក ៣

១- ធម៌ទាំងឡាយ ដល់នូវកិរិយាបង្កើតឡើងហើយ ប្រព្រឹត្តទៅចាប់ដើមអំពីបង្កើតឡើង ដរាបដល់បែកធ្លាយទៅវិញ ។

២- ធម៌ទាំងឡាយ មិនទាន់បង្កើតឡើងហើយ ។

៣- ធម៌ទាំងឡាយ ទំនងបង្កើតឡើងដោយឯកទេស ជាហេតុដ៏សម្រេចហើយមែនពិត ។

## ១៨-អតីតត្តិក ៣

១- ធម៌ទាំងឡាយ ដល់នូវសភាពនៃខ្លួន ហើយប្រព្រឹត្តកន្លងទៅ ។

២- ធម៌ទាំងឡាយ មិនទាន់មានមកហើយ ។

៣- ធម៌ទាំងឡាយ ដ៏អាស្រ័យហេតុនោះៗ ហើយបង្កើតឡើង ។

## ១៩- អនត្ទរត្តិក ៣

១- ធម៌ទាំងឡាយ មានអារម្មណ៍ប្រព្រឹត្តកន្លងទៅហើយ ។

២- ធម៌ទាំងឡាយ មានអារម្មណ៍មិនទាន់មកដល់ហើយ ។

៣- ធម៌ទាំងឡាយ មានអារម្មណ៍ដ៏អាស្រ័យនូវហេតុនោះៗ ហើយបង្កើតឡើង ។

## ២០- អជ្ឈត្តត្តិក ៣

១- ធម៌ទាំងឡាយ ធ្វើនូវខ្លួនឲ្យក្រៃលែងហើយប្រព្រឹត្តទៅ ។

២- ធម៌ទាំងឡាយ ជាប់ដោយឥន្ទ្រិយក្តី គ្រាន់តែបង្កើតឡើងជាខាងក្រោយ ។

៣- ធម៌ទាំងឡាយ ធ្វើនូវខ្លួនឲ្យក្រៃលែងហើយប្រព្រឹត្តទៅក្តី ជាប់ដោយឥន្ទ្រិយក្តី គ្រាន់តែបង្កើតហើយជាខាងក្រៅក្តី ។

## ២១- អជ្ឈត្តារម្មណត្តិក ៣

១- ធម៌ទាំងឡាយ មានអារម្មណ៍មានសភាពធ្វើនូវខ្លួនឲ្យក្រៃលែងហើយប្រព្រឹត្តទៅ ។

២- ធម៌ទាំងឡាយ មានអារម្មណ៍គ្រាន់តែបង្កើតហើយជាខាងក្រៅ ។

៣- ធម៌ទាំងឡាយ មានអារម្មណ៍ធ្វើនូវខ្លួនឲ្យក្រៃលែងហើយប្រព្រឹត្តទៅផង គ្រាន់តែបង្កើតហើយជាខាងក្រៅផង ។

## ២២- សនិទស្សនត្តិក ៣

១- ធម៌ទាំងឡាយប្រព្រឹត្តទៅមួយអន្លើដោយនិទស្សនគឺបណ្ឌិតពោលថា ការធម៌ដែលខ្លួនគប្បីឃើញផង ប្រព្រឹត្តទៅមួយអន្លើដោយកិរិយាប្រកួតប្រកាន់ផង ។

២- ធម៌ទាំងឡាយ មាននិទស្សន គឺបណ្ឌិតពោលថា ការធម៌ដែលខ្លួនគប្បីឃើញមិនមានផង ប្រព្រឹត្តទៅមួយអន្លើដោយកិរិយាប្រកួតប្រកាន់ផង ។

៣- ធម៌ទាំងឡាយ មាននិទស្សន គឺបណ្ឌិតពោលថា ការធម៌ដែលខ្លួនគប្បីឃើញផង មានកិរិយាប្រកួតប្រកាន់មិនមានផង ។

រួមជាតិក្កមាតិកា ២២ ក្នុងបករណឈ្មោះ ធម្មសង្គណី ចប់តែប៉ុណ្ណោះ។

# សុវិជ្ជា

ថី ឆ-គិមហាក់ ជាអ្នកគ្រូកត្រារាជការខ្សែល្អស នៅស្រុកមោងឫស្សី

រៀបរៀង

សុវិជ្ជានេះ ខ្ញុំទើបនឹងរិះ គិតជាបឋម
តែងជាពាក្យប្អូន ជូនពុំឧត្តម អ្នកប្រាជ្ញចាស់ទុំ
កុំបីនិន្ទា ។

ខ្ញុំបាទសូមរៀប តែងតាមរបៀប ពីសុវិជ្ជា
គឺវិជ្ជាល្អ ក្រៃក្រមហិមា ឈ្មោះសស់មាក
គិរេកៈច្រើនក្រៃ ។

នរូឯណា ស្អប់ខ្ពើមទុក្ខា កើតក្នុងគពក្រៃ
ចង់ធ្វើឲ្យប្រាស ឱកាសចាជ្រៃ ត្រូវគិតកែខៃ
រៀនសិល្បសាស្ត្រ ។

រៀនសុវិជ្ជា ខ្ជីសំការ ក្បីផ្ទុកស្អាងស្អាត
ជនត្រូវប្រាជ្ញា មិនត្រូវប្រមាទ ត្រូវច្នៀតសម្អាត
ស្វែងយកឲ្យបាន ។

បើមិនទំរក ទុក្ខនឹងចូលមក ប្រៀតជ្រកក្នុងប្រាណ
ញាប់ញ័ររន្ធត់ ស្លុតចិត្តឥតក្សាន្ត ដាច់ក្តីកប់អាទ
សន្តានមើលឆាយ ៗ

នាទីប្រជុំ បណ្ឌិតតូចធំ ខ្មៅពុំពណ្ណរាយ
ដូចជាសត្វក្អែក ខ្មៅហួសនិយាយ កណ្តាលហ្វូងនាយ
បក្សាហង្សស្រត្វ ៗ

រីព្រះសុរិយា រស្មីជ្រះថ្លា អាកាសភ្លៀលធ្លាក់
ពុំស្មើវិជ្ជា ភ្លឺគ្មានបេះបាត់ ពុំបេះរសាត់
អាប់ខុនទៅណា ៗ

អស់ទ្រព្យសម្បត្តិ ដួនកាលប្រែឃ្លាត់ វិនាសអសារ
វិជ្ជានេះឯង តែងជាប់កាយា ពោរនឹងប្រាជ្ញា
លួចលាក់ពុំបាន ៗ

អាវុធនានា សឹងពាញរំពា វិជ្ជាកល្យាណ
មុតលើសព្រះខ័ន ពេជ្រនិលសូរ្យកាន្ត សស្រ្តាប៉ុន្មាន
ពុំស្មើឡើយនៃ ៗ

វិជ្ជាឲ្យមាន សម្បត្តិធនធាន មាសប្រាក់ទីទៃ
ពាសីពាសា សួនច្បារប្រពៃ ឲ្យមានជោគជ័យ
ល្បីសព្វទិសា ៗ

| | | |
|---|---|---|
| វិជ្ជាឲ្យមិត្ត | ឲ្យញាតិវង្សតែ | ស្រឡាញ់ស្នេហា |
| ឲ្យយសថ្កុំថ្កើង | រុងរឿងសក្កា | វិជ្ជាត្រៀវត្រា |
| | ការពារអកុសល | ។ |
| វិជ្ជាឲ្យសុខ | គ្មានព្រួយវិតក្ក | ទុក្ខពុំហានពាល់ |
| ធ្វើឲ្យចិន្តា | ជ្រះថ្លាពេកសល់ | វិជ្ជាតម្កល់ |
| | ក្តីសុខកងកាយ | ។ |
| ប្អូនឯណា | មានពួកបណ្តា | ក្សត្រច្រើនប្រាជ្ញប្រាយ |
| ប្អូននោះឯង | វែងល្បីសព្វសាយ | នគរទាំងឡាយ |
| | ខ្ចបខ្ចាចគេដៃ | ។ |
| បិតាមាតា | បើបានបុត្រា | ធ្លាតវិជ្ជាក្រៃ |
| លោកសឹងសរសើរ | ដំណើរបុត្រថ្លៃ | ដោយបុណ្យនិស្ស័យ |
| | ជ័យាក្សេមក្សាន្ត | ។ |
| វិជ្ជាជាគុណ | ឲ្យអស់មហាជន | គន់គិតគ្រប់ប្រាណ |
| សម្គាល់ត្រូវខុស | ទាបខ្ពស់ប៉ុន្មាន | ឲ្យយល់សណ្ឋាន |
| | សន្តានពាលខ្លៅ | ។ |
| ឲ្យស្គាល់តូចធំ | ស្គាល់ក្មេងចាស់ទុំ | ដឹងត្រជាក់ក្តៅ |
| ឲ្យស្គាល់ធ្ងន់ស្រាល | ដុតអាលម្អឹងម្អៅ | ស្គាល់ទឹកងក្រៅ |
| | ស្គាល់ហៅក្រាស់ស្តើង | ។ |

បានបុណ្យកាលណា ឲ្យដឹងខ្លួនថា មិនត្រូវតម្កើង
ត្រូវតែបន្ទាប សុភាពទើបថ្កើង មិនត្រូវឲ្យឆ្មើង
យើងគេទន្ទា ៗ

ឲ្យចេះរក្សា ឲ្យចេះខាំងខា ឲ្យប្រឹងការពារ
កេរ្តិ៍ពុកម្តាយ សាយសព្វឆាឆា ឲ្យបានឆាមា
ក្រអូបលប់ផ្កា ៗ

ឲ្យចេះតបស្នង មិនឲ្យកន្ទង គុណគ្រូអាចារ្យ
ឲ្យចេះអភិវាទ មាតាបិតា ស្រឡាញ់ស្នេហា
រក្សារួមរ័ក្ស ៗ

បើចង់ធ្វើឈ្មួញ កុបតែងជំនួញ លក់ដូរបណ្តាក់
វិជ្ជាឲ្យស្គាល់ យល់ការជ្រៅកក់ ហ៊ានពួកអ្នក
ពាណិជ្ជកល់គ្នា ៗ

វិជ្ជាចង្អុល ប្រឹងខំពន្យល់ បង្ហាញមាគ៌ា
ដឹកនាំទំនិញ ចេញចូលនាវ ឲ្យកើតលាភា
អនេកឱកាស ៗ

ពាណិជ្ជមួយ ៗ ឲ្យចេះមានព្រួយ រិះរកប្រាក់មាស
កុំឆកុំឆក់ កុហកអស់ក្រុត សូវឲ្យវិនាស
ជាផាងល្អបគេ ៗ

ឲ្យបេះសម្តី កាន់ជនប្រុសស្រី វៃវេះរិះរេ
ឲ្យជនផងស្ងួន ដូចកូនទិនមេ នោះឯងទើបគេ
ជួយទិញជួយដូរ ។

ធ្វើចិត្តឲ្យត្រង់ សេធម៌កុំបង់ កុំកំណាញ់ស្វូ
ជនជាតិអប្បលក្ខណ៍ ចិត្តស្មគ្រអាសូរ ករុណាឲ្យដូរ
ផង់កល់វេលា ។

វិជ្ជាឲ្យស្គាល់ ឲ្យកោតខ្លាចដល់ អង្គព្រះពុទ្ធា
បរមសាស្ដា ទេវតាយក្សមារ ឲ្យខំបូជា
វន្ទាសព្វថ្ងៃ ។

ឲ្យស្គាល់មេត្តា ឧត្តមសាក្យា មុនីចរណៃ
លុបលើសសត្វផង កន្ទង់ភពត្រៃ ជនមានទិស្ស័យ
គ្រេបរសពុំខាន ។

ឲ្យស្គាល់ព្រះធម៌ ប្រកបដោយគុណ ភ្លឺជាងសុរិយាន
មរណជក ព្យាធិប៉ុន្មាន និកសរទៅបាន
អមតបូរី ។

ឲ្យស្គាល់ព្រះសង្ឃ ផុតជាប់ចំណង់ ត្រេកកាមលោកិយ
តណ្ហាស្ងប់ស្ងាត់ បង់បាត់ស្នើ គួរជនប្រុសស្រី
អើតើធ្វើមាន ។

ព្រះសង្ឃដូចស្រែ ជាប់ដីឥតល្ហែ លូតលាស់ធនធាន
ឲ្យផលឧត្តម ស្តុកស្តម្ភក្រមាន បេះញុំាងអស់ពាន
ឲ្យរីកកាយផាស ៗ

វិជ្ជាឲ្យដឹង ឲ្យជនប្រុងប្រឹង ធ្វើតាមពុទ្ធសាសន៍
វេទនប្រសើរ ជាតិប្រហើរណាស់ ឲ្យអស់ក្មេងចាស់
សង្វាតសិក្សា ៗ

ឲ្យខំធ្វើបុណ្យ មិនឲ្យទូរជន កំណាញ់ឫស្យា
កុសលតូចធំ គោងខំប្រាប់ យកមកប្រើការ
បណ្ដេញលោភោ ៗ

វិជ្ជាជួយដុះ ឲ្យដឹងថាខុស ទោសនោះជ្រះផោ
តែកើតឡើងហើយ អ្នកកើយសន្ដោ ដូចក្ដីនៅក·
ពេនគេណា ៗ

ឲ្យបេះពិតពិល ឲ្យខំមើល សម្គាល់តណ្ហា
តែងបង្អឹកចិត្ត ឲ្យស្និទ្ធប្រាថ្នា នាំកើតសោកា
ទុកផ្សាក្ដៅ ៗ

លោភកាយធំ ឈឺឈ្មួលអួលក្រំ ដំណាំហ្មងសៅ
ញាំញីដួងចិត្ត ប្រព្រឹត្តការខ្លៅ លោកប្រដៅ
ឲ្យបង់កែបាន ៗ

បានហើយចង់ទៀត ទុកបង្អៀត ស្មើរប្រែះពីប្រាណ
ហឫទ័យកង្វល់ សល់សែនរំខាន ក្នុងខន្ធសន្តាន
ពីព្រោះប្រាថ្នា ៗ

វិជ្ជាពន្យល់ ឲ្យបេះតទល់ សម្លាប់តណ្ហា
ឲ្យបរិចាគទាន ជាគ្រឿងសស្ត្រា មកផ្ចាញ់ចេស្តា
តណ្ហាអប្រិយ ៗ

វិជ្ជាពញ្ញាក់ ធ្វើឲ្យសត្វភ្ញាក់ កល់រូបប្រុសស្រី
ដឹងគិតទៅថា លោកាទាំងបី ទោសៈអប្រិយ
ដុះមីរគ្រៀបគ្រា ៗ

គួរឲ្យប្រយ័ត្ន គួរខំកំចាត់ បំបាត់ទោសា
នាំកាយឲ្យព្រួយ លួយចិន្តា ខុសទឹងរជការ
ខាតទ្រព្យសម្បត្តិ ៗ

វិជ្ជាឲ្យដឹង បើចង់បាត់ទឹង ឲ្យកាន់សីលថ្វាត់
សីលប្រាំប្រាំបី ប្រយោជន៍ច្រើនក្តាត់ សីលអាចនាំសត្វ
កាត់កេទិញ្ញាន ៗ

| | | |
|---|---|---|
| សីលជាឱសថ | ពូកែបំហុត | រកអ្វីស្មើគ្មាន |
| វិជ្ជាញុំាំងជន | ឲ្យជនសូត្ររៀន | សីលជាប្រធាន |
| | នាំក្តីសុខា | ៗ |
| វិជ្ជាបង្អើល | ឲ្យជនផ្អូកផ្អើល | បារម្ភចិន្តា |
| ថាបាបមួយម៉ាំ | សម្បើមណាស់សា | គឺតួមោហា |
| | វង្វេងងងឹត | ៗ |
| ឃើញតូចថាធំ | ឃើញកាយថាជុំ | ឃើញឆ្ងាយថាជិត |
| គុណថាជាទោស | សត្រូវថាមិត្ត | ជនអើយគួរគិត |
| | អាសូរអាត្មា | ៗ |
| មើលមានវិជ្ជា | ឲ្យយកការនា | ពិឃាដមោហា |
| ទោរគោបកក្ខិប | តែងជិតរូបា | កាន់ទុក្ខសោកា |
| | មហាច្រើនសល់ | ៗ |
| ការនាជាថ្នាំ | សម្រាប់ដុសត្រាំ | មើលឧបាយកល |
| វង្វេងកើតហើយ | អ្នកអើយកុំទ្រល់ | យកការនាផ្តល់ |
| | ផ្តាច់តួមោហា | ៗ |

ហៃសប្បុរស ចូលបេះឈោកផ្កោះ ឲ្យតាកបេញណា
ពីមេបាបបី ស្ដេចចោរក្លៀវក្លា ទើបឃើញអមតា
និញ្ញានពណ្ណកយ ៗ

ចូលខំប្រព្រឹត្ត ចិញ្ចឹមជីវិត ឲ្យល្អព្រោងព្រាយ
តាមធម៌សុចរិត កុំឲ្យបាបលាយ នាំឲ្យកយមាយ
អាប់ឱនសិរី ៗ

ឲ្យគ្រាប់ពូកឃុំ គំនិតមធ្យម លើសលើបក្សី
ព្រឹកឡើងកាលណា ចូលកាន់រុក្ខ ក្រេបរសពិសី
បុប្ផាតាំងឡាយ ៗ

ដូចជាបណ្ឌិត ប្រកបគំនិត យល់ការវែងឆ្ងាយ
បេះប្រឹងស្វែងរក វត្ថុឆើតឆាយ ពុំដែលមានណាយ
សោយទ័យា ៗ

កុំគ្រាប់ពូករុយ មារយាទទុយមុយ អាក្រក់មហិមា
ព្រឹកព្រាងស្វាងថ្ងាត់ គេចកាត់ម្ជូរ រកពេមអស់លា-
មកស្មុយជាប់ជាស ៗ

សត្វរុយប្រៀបដូច បុគ្គលពាលខូច ប្រាជ្ញាកាមគ្រាស់
មិនស្គាល់សេពិត កាសិតពុទ្ធសាសន៍ នាំខ្លួនឲ្យប្រាស
និកស័ក្តិសុខ ៗ

សប្បុរសគប្បី ស្គាល់ជាតិលោកិយ ច្រើនកាមវិតក្ក
កិលេសអប់រំ នាំកាយអផ្សុក ពុំបានស្រណុក
ក្នុងលោកនេះណា ។
គួរខំរេះរាង បញ្ញាឲ្យឃ្លាង ចេះធ្វើបុណ្យ
កុំឲ្យជេកគ្រាំ ក្នុងកាមតណ្ហា ឲ្យខំសិក្សា
អដ្ឋង្គិកមគ្គ ។
រីផ្កាបទុម ពីដោរកើរម្យ បរបូណ៌នលក្ខណ៍
កើតអំពីភក់ បឹងត្លុកជ្រៅភក់ តែពុំចេះស្មោគ្រ
ទឹងសង្ហារខ្លួន ។
ប្រឹងផុះលូតលាស់ រសាយចេញអស់ ល្អាត់ចំជួន
ផុតទឹកកាលណា បុប្ផាក្លាយខ្លួន ខ្លួនរោះគួរស្ងួន
ផល់ជនខានា ។
នេះដូចសប្បុរស ចង់តែរដោះ ពីកិលេសមារ
ប្រឹងខំធ្វើទាន មានសីលភាវនា តាមផ្លូវពុទ្ធា.
នុញ្ញាតវិសេស ។
កុំធ្វើតាមជ្រូក យកភក់ធ្វើពួក ដេកធ្វើក្រអែះ
បានបាយកោក្កា ជាខ្លួនវិសេស ចេះតែប្រហែស
មិនគិតតទៅ ។

| | | |
|---|---|---|
| រូបជាប់ក្នុងទ្រូង | របងផ្គ្រង់ | ធំ ៗ សន្ធៅ |
| ពុំដែលចង់ចេញ | ចាកទីលំនៅ | ភក់ច្រើនយ៉ាងជ្រៅ |
| | នៅស៊ូតែត្រាំ | ៗ |
| មិនដឹងខ្លួនថា | បន្តិចទៀតណា | ខ្លួននឹងសោយកម្ម |
| គេនឹងសម្លាប់ | សាច់សាប់ចញ្ច្រាំ | យកមកស្ងោរដាំ |
| | ប្រលាក់ញាំផា | ៗ |
| ជ្រកដូចពាលខ្លៅ | ចិត្តអាក្រក់ខ្មៅ | អាប់ឥតប្រាជ្ញា |
| ហឫទ័យប្រតិព័ទ្ធ | នឹងវត្ថុសង្សារ | ថាគ្មានបានណា |
| | ប្រសើរជាងបាន | ៗ |
| ជនអើយសូមគិត | សូមជួយពិនិត្យ | ពាក្យអម្បាលម៉ាន |
| ដែលខ្ញុំបានពោល | ចំពោះសន្តាន | មើលល្អមកប់អាន |
| | ចូរសិក្សាហោង | ៗ |



# សេចក្ដីរាយការណ៍

អំពីដំណើរទៅក្នុងដែនកូសាំងស៊ីនចំពោះខែត្រដែលមានវត្ត

លោកសង្ឃខ្មែរ

ព្រះគ្រូសង្ឃវិជ្ជា ហួត តាត

អាចារ្យបង្រៀនភាសាសំស្រ្កឹតនៅសាលាបាលីជាន់ខ្ពស់

រៀបរៀង

- ២ -

## ដំណើរចេញពីខេត្តបាក់លីវ

ថ្ងៃ២៤ ខែយ៉ាំងវីយេឆ្នាំ១៩២៨

វេលាម៉ោង៨កន្លះព្រឹក ចេញពីខេត្តបាក់លីវមក ដល់ម៉ោង ១០ ព្រឹកដល់មកស្រុកគ្រាំង( ខ្មែរហៅខេត្តឃ្លាំង ) ឈប់នៅផ្ទះលោក ឡាដមីនិស្រ្តាទ័រ ចំនួន៣០មីនុត ហើយលោកចៅហ្វាយស្រុក អ៊ឹម ជាតិខ្មែរ បានជូនដំណើរបន្តួសទៅឯវត្តឃ្លាំង ក្នុងបុំញាំឡាង ១ណ្តាញ់វ៉ាញ់ ដ៏ត គ្នាទឹងប៉ុស្តិ៍ឃ្លាំងនោះខ្លួនខ្ញុំនិងឈ្មោះដី បានឈប់សំណាក់នៅវត្តឃ្លាំងនោះ រីឯអ្នកស្រីចាងហ្វាងព្រះរាជបណ្ណាល័យ ក៏ត្រឡប់ទៅវិញ១រំពេចទៅសំណាក់អាស្រ័យ នៅនាទីផ្ទះសម្រាប់សំណាក់របស់រាជការ ក្នុងកំផែងជាមួយនឹងផ្ទះលោកឡាដមីនិស្រ្តាទ័រ ចំណែកខ្លួនខ្ញុំដែលទៅអាស្រ័យ

នៅវត្តឃ្លាំងនោះ កាលដែលទៅបាន១ស្របក់ កំពុងតែនិយាយសន្ទនា នឹងលោកអធិការលន់ ស្រាប់តែឃើញលោកព្រះវិនយធម្មសារដែលលោក គង់នៅភ្នំពេញវត្តជាមួយគ្នាកុដិជិតគ្នានឹងខ្ញុំនិមន្តមកពីក្រោយ ហើយខ្ញុំសួរ លោកក៏បានដំណឹងក្នុងពេលនោះថា និមន្តមកយូរថ្ងៃហើយ ដើម្បីមកជួយ ចាត់ចែងកិច្ចធ្វើបុណ្យបូជាសព លោកគ្រូព្រះសពវត្តនេះ លុះដល់ពេល ឆាន់រួចហើយលោកអធិការលន់ លោកក៏មានព្រះទ័យល្អបានចាត់ចែង រៀបចំទីកន្លែង១ឲ្យសឹងនៅក្នុងបន្ទប់ ១ ជិតគ្នានឹងកន្លែងលោកព្រះវិនយធម្ម សារ ហើយលោកបានទាំងចាត់ចែង ភោជនាហារគ្រប់ពេលដរាបដល់ ពេលចេញពីវត្តនេះ ខ្ញុំមានអំណរក្រៃពេកនឹងគុណលោក ដែលលោក មានចិត្តល្អ ហើយបានចាត់ចែងដូចពោលលើនេះ ។ រីឯវត្តឃ្លាំងជាវត្ត ធំ ហើយល្អស្អាតជាងវត្តឯទៀត ១ ក្នុងខេត្តឃ្លាំង ។

## ដំណើរក្នុងខេត្តឃ្លាំង

នៅវេលាម៉ោង៣សៀលថ្ងៃខែជាមួយគ្នា ចាងហ្វាងព្រះរាជបណ្ណាល័យបានអញ្ជើញទៅឯវត្តឃ្លាំង ក្រោយបន្តិចលោកចៅហ្វាយស្រុកអឹម ក៏អញ្ជើញទៅដល់ទៀត ហើយជួបជុំគ្នា នៅលើទីកុដិ លោកអធិការ លន់ ។ និងលោកសង្ឃក្នុងវត្តនោះក៏មកជួបជុំព្រមគ្នា ទើបចាងហ្វាងព្រះ រាជបណ្ណាល័យ បានសួរលោកអធិការ ដូចរបៀបសួរក្នុងវត្តឯទៀត ១ ហើយបានប្រគេនសៀវភៅនិងរូបថតពុម្ពដល់លោកអធិការ រួចហើយ

បានសន្ទនានឹងលោកចៅហ្វាយស្រុក អិម ពីការគិតបង្កើតសាលារៀនក្នុងវត្តសម្រាប់បង្រៀនអក្សរខ្មែរនិងព្រះពុទ្ធសាសនា លោកចៅហ្វាយស្រុកអិមក៏យកចិត្តទុកដាក់ក្នុងការនេះផង ដោយលោកជាតិជាខ្មែរ មានសេចក្ដីចូលចិត្តខាងចំណេះវិជ្ជាខ្មែរ និង ព្រះពុទ្ធសាសនាពេញបន្ទុក ។

ដល់ម៉ោង ៤ កន្លះរសៀល ចេញពីវត្តឃ្លាំងចំពោះទៅវត្តសង្កែក្នុងឃុំអូយឡូយ ខណ្ឌញីរខាញ់ លោកចៅហ្វាយស្រុកអិម ក៏ជូនទៅផង លុះទៅដល់លោកចៅអធិការនាម អ៊ុន ក៏បានធ្វើបដិសណ្ឋារៈដោយគួរសម ហើយអញ្ជើញឲ្យឡើងទៅលើកុដិលោក ចាងហ្វាងព្រះរាជបណ្ណា-ល័យក៏បានសួរនិងប្រគេនសៀវភៅដូចវត្តឯទៀត រួចចេញពីវត្តសង្កែត្រ-ឡប់មកកាន់ទីសំណាក់ដើមវិញ ។

ថ្ងៃ ២៥ ខែយ៉ុំងវីយេ ឆ្នាំ ១៩៤៨

លោកចៅហ្វាយស្រុក អិម បាននិមន្តលោកសង្ឃដែលគង់នៅវត្តជិត ៗ មកប្រជុំនៅវត្តឃ្លាំង បានចំនួន ៦ វត្ត គឺវត្តព្រែកអណ្ដើក ១ វត្តទទឹមចាស់ ១ វត្តទទឹមថ្មី ១ វត្តស្រឡូង ១ វត្តកណ្ដាល ១ វត្តសំពេង ១ ព្រមទាំងវត្តឃ្លាំង ១ ទៀតត្រូវជា ៧ វត្ត ក្នុងពេលដែលជួបជុំនៅវេលាម៉ោង ៩ កន្លះព្រឹក ចាងហ្វាងព្រះរាជបណ្ណាល័យ និងលោកចៅហ្វាយស្រុក អិម លោកចៅហ្វាយខណ្ឌស្ទួនក៏អញ្ជើញមកជួបជុំក្នុងទីជាមួយគ្នា ហើយចាងហ្វាងព្រះរាជបណ្ណាល័យ ក៏និយាយពន្យល់ អំពីការគិតបង្កើតឲ្យមាន

សាលាក្នុងវត្ត សម្រាប់បង្រៀនអក្សរខ្មែរ និងបង្រៀនធម្មវិន័យ ព្រះពុទ្ធសាសនាក្នុងខេត្តឃ្លាំងនេះ លោកចៅហ្វាយស្រុក អ៊ិម ជាអ្នកប្រែភាសាពីបារាំងមកជាខ្មែរឲ្យលោកសង្ឃគ្រប់វត្តនោះស្តាប់ លោកសង្ឃគ្រប់វត្តនោះក៏ឥតមានយល់ទាស់ព្រមព្រៀងចូលចិត្តត្រេកអរគ្រប់អង្គ ចាងហ្វាងព្រះរាជបណ្ណាល័យក៏និយាយពន្យល់តទៅទៀតពីកិច្ចដែលបង្រៀននោះគឺបង្រៀនខាងក្មេង ៗ ឲ្យចេះមើលចេះសរសេរអក្សរខ្មែរឲ្យត្រឹមត្រូវ ដល់វេលាល្ងាចបង្រៀនធម្មវិន័យព្រះពុទ្ធសាសនា ដល់ភិក្ខុសាមណេរតាំងអំពីកិច្ចស្លៀកពាក់ជាដើម ព្រោះអ្នកបួសក្នុងសាសនានេះ កាលបើចេះស្លៀកពាក់ឲ្យស្អាតបាតជាបរិមណ្ឌលល្អហើយ អ្នកទាំងពួងគេមើលទៅឃើញគ្រឿងស្លៀងពាក់តែពីខាងក្រៅ ក៏គេនឹងអាចចូលចិត្តបាន ថាលោកទាំងអស់នេះសុទ្ធតែចេះដឹងល្អ ហើយក៏បណ្ដាលឲ្យសេចក្ដីជ្រះថ្លាទៅបាន បើអ្នកបួសក្នុងសាសនានេះ មិនចេះរៀបខ្លួនឲ្យស្អាតបាតល្អ ស្លៀកពាក់ស្បង់ចីពររយីករយាក កាលបើអ្នកទាំងពួងគេមើលទៅឃើញរយីករយាកដូច្នោះ គេក៏នឹងនឹកក្នុងចិត្តថាអ្នកបួសទាំងអស់នេះសុទ្ធតែល្ងង់ គ្រាន់តែស្លៀកពាក់ឲ្យស្អាតឲ្យជាបរិមណ្ឌលក៏មិនចេះដែរ ម៉្លោះហើយក៏នាំឲ្យគេមើលងាយបាន ហើយចាងហ្វាងព្រះរាជបណ្ណាល័យបាននាំរឿងចំពោះខ្លួនឯង ថាដូចកាលដែល ខ្ញុំបានទៅស្រុកសៀម ឃើញលោកសង្ឃស្រុកសៀមស្លៀកពាក់បែបផ្សេង កាលទៅនគរវត្តក្នុងខែត្រសៀមរាប ឃើញលោកសង្ឃស្លៀកពាក់របៀបផ្សេង ព្រោះហេតុនេះកិច្ចដែលបង្រៀននោះ ខាង

ចំណែកវិន័យ គួរបង្រៀនអំពីកិច្ចស្លៀកពាក់ជាដើម ។

លោក ចៅហ្វាយស្រុក អ៊ិម ក៏ប្រែមកជាខ្មែរពិត លោកសង្ឃគ្រប់វត្តនោះឲ្យស្តាប់ ក្នុងវេលានោះមានលោកគ្រូ ១ អង្គ ឈ្មោះ បច្ឆិមកម អ៊ុក ឆ្លើយឡើងជួសលោកគ្រប់វត្តថា ពាក្យនេះត្រូវណាស់ ពាក្យនេះជាពាក្យខាងពុទ្ធសាសនាមិនមែនខាងសេយ្យសាសន៍ទេ ពាក្យនេះគួរតែយើងប្រតិបត្តិតាម លុះរួចការប្រជុំហើយចាងហ្វាងព្រះរាជបណ្ណាល័យ ក៏បានប្រគេនសៀវភៅនិងរូបផ្តិតពុម្ពដល់លោកអធិការគ្រប់វត្ត ។

ដល់ម៉ោង ១ កន្លះរសៀល ចេញទៅម្តងទៀត លោកចៅហ្វាយស្រុក អ៊ិម មានកិច្ចរវល់មិនបានជូនដំណើរទៅ បានឲ្យលោកចៅហ្វាយខ័ណ្ឌឈ្មោះទី ជាអ្នកជូនដំណើរ មុនដំបូងចំពោះទៅវត្តទទឹមចាស់ លុះដល់ទៅក៏មិនបាននៅយូរ គ្រាន់តែឡើងទៅលើកុដិ ១ រំពេច ហើយចុះទៅមើលវិហាររួចក៏ចេញមកវិញ ព្រោះលោកអធិការវត្តនេះ បានទៅជួបជុំនៅវត្តឃ្លាំងរួចហើយ រួចត្រឡប់ទៅវត្តបាយឆៅ កាលដែលទៅដល់ជិតវត្ត ឃើញកេងមួយវែងធ្វើដោយបេតុងអារម៉េ ដល់សួរទៅគេប្រាប់ថាកេងនេះសម្រាប់ដាក់ទូកង លុះដល់ចូលទៅក្នុងវត្តបានឡើងទៅលើកុដិលោកអធិការ ៗ នេះនាមអ៊ិន លោកជាឧបជ្ឈាយ៍ធំ ។ ចាងហ្វាងព្រះរាជបណ្ណាលល័យ បានសួរដូចវត្តឯទៀត តែត្រង់ដែលសួរពីកិច្ចបង្កើតឲ្យមានគ្រូបង្រៀននោះ លោកអធិការឆ្លើយថា វត្តនេះនឹងបង្កើតឲ្យមានគ្រូបង្រៀននិងសាលាបង្រៀនមិនកើតទេ ព្រោះមិនសូវមានឧបា

សកដើរវត្ត មានខ្លះតែនៅឆ្ងាយ ៗ ណាស់នៅជិតវត្តមានតែយួននិងចិន រួចចាងហ្វាងព្រះរាជបណ្ណាល័យ ក៏បានប្រគេនសៀវភៅនិងរូបថតពុម្ពខ្លះ ហើយចុះទៅមើលវិហារ ៗ នោះសព្វថ្ងៃនេះ ចាស់បាក់បែកច្រើនណាស់ ហើយលោកកំពុងតែគិតកសាងជាថ្មី រួចចេញពីវត្តបាយនៅ ឆ្ពោះត្រង់ទៅប្រាសាទគង ៗ នេះ កាលពីដើមជាវត្តមានកេរ្តិ៍ឈ្មោះថា ជាវត្តមានឧបជ្ឈាយ៍ធំ ព្រោះកេរ្តិ៍ឈ្មោះរហូតដល់ស្រុកខ្មែរយើង ក្នុងវេលាដែលទៅដល់ក្នុងជាន់នេះ លោកអធិការវត្តក៏មិននៅ ឃើញភិក្ខុសាមណេរយើករយាកនៅក្នុងវត្តមិនសូវរកបសា វិហារក៏ពុកបាក់បែកខ្ទុះឆ្ងាយច្រើន បានឃើញភិក្ខុ១រូបអើតតាមបង្អួចហើយនិយាយពាក្យមិនសមគួរ មិនមែនជាពាក្យរបស់អ្នកបួសរួចលិបខ្លួនចូលបាត់ទៅវិញ ។

ចាងហ្វាងព្រះរាជបណ្ណាល័យ ក៏មិននៅយូរព្រោះមិនជួបនឹងលោកអធិការហើយចេញមកវិញ ១ រំពេចត្រឡប់មកឈៀងចូលទៅឯវត្តព្រែកអណ្តើក ចូលទៅវត្តនេះក៏មិនបាននៅយូរ គ្រាន់តែមើលទីកុដិ និងវិហាររួចចេញមកវិញ ព្រោះវត្តនេះបានទៅជួបជុំឯវត្តយ៉ាងរួចហើយ ៗ ត្រឡប់មកឯទីបុស្តិ៍វិញឃើញនៅសល់ពេលច្រើន ក៏ចេញទៅទៀតចំពោះទៅវត្តគានព តាមផ្លូវ ១ ផ្សេង កាលដែលទៅដល់បានឃើញវត្តគានពនោះ ជាវត្តធំមាំមួន វិហារក៏ល្អគ្រាន់បើ របៀបទីវត្តក៏រៀបរយល្អ តែមិនបានជួបនឹងលោកអធិការ ជួបតែនឹងលោកគ្រូសូត្រ ហើយសួរផ្លូវវត្តឯទៀត រួចចេញពីវត្តនេះបង្ហួសទៅឯវត្តពានសិទ្ធិ ក្នុងខណ្ឌញីវខាញ់ កាលដែល

ទៅដល់ក៏បានឃើញវត្តនោះជាវត្តធំមាំមួនដែរ ទីវិហារក៏ល្អ កុដិសាលាក៏មានរបៀបល្អ តែកាលដែលទៅដល់វេលាល្ងាចណាស់ហើយ ពេលដិតយប់ទទួលលោកអធិការមិននៅផង ហេតុនោះយើងមិនបានចូលទៅក្នុងវិហារឡើយ គ្រាន់តែឡើងទៅលើកុដិដើម្បីនឹងមើលពានសិរិទ្ធិ ដល់ឡើងទៅក៏ឃើញពាននោះតែ ១ កំណាត់ខាងលើ តែគេយកទៅភ្ជាប់នឹងពានធម្មតា សព្វថ្ងៃនេះគេប្រកស្រោមតម្កល់ទុកនៅមុខ ព្រះពុទ្ធរូបក្នុងកុដិ ប្រហែលជាគេសន្មតទុកថា ជារបស់មង្គល មានលោកសង្ឃក្នុងវត្តនេះប្រាប់ថាពានសិរិទ្ធិ ១ កំណាត់នេះ គេជីកដីទៅឃើញយូរឆ្នាំហើយ ព្រោះហេតុនេះ បានជាគេសន្មតឈ្មោះវត្តនេះថា វត្តពានសិរិទ្ធិ លុះរួចកិច្ចនេះហើយក៏ត្រឡប់ចេញមកវិញ ១ រំពេច ដល់មកទីសំណាក់ដើមវិញ ក្នុងពេលម៉ោងជាង ៧ យប់ ។

ថ្ងៃ ២៦ ខែយ៉ាំងវីយេ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ ព្រឹក ចេញទៅវត្តខ្សាច់ (យួនហៅកាសាច់)ក្នុងឃុំកៀកឡាយ ខណ្ឌញីវ៉ាញ់ កាលទៅដល់បានឃើញវត្តនោះ ជាវត្តតូចស្ដួចស្ដើង ហើយមិនជួបនឹងលោកអធិការផង ទើបចេញមក ១ រំពេច ហើយចយត្រឡប់ចូលទៅវត្តចម្ប៉ា ក្នុងឃុំឡាយគីម ខណ្ឌញីវ៉ាញ់ វត្តនេះជាវត្តធំមាំមួនមានភិក្ខុសាមណេរ-ក្មេងក៏ច្រើន ញាតិញោមជើងវត្តក៏មាន

បំនួនច្រើន លោកអធិការវត្តនេះនាមប៉ែន ជាឧបជ្ឈាយ៍មានគ្រូសូត្រ ២ អង្គ ១អង្គឈ្មោះអ៊ឹត ១ អង្គទៀតឈ្មោះកែស ។ នេះ លោកចេះប្រែបាលីជាខ្មែរ បានកាលដែលយើងបានចូលទៅដល់ លោកក៏ចុះមកទទួលធ្វើបដិសណ្ឋារ ដោយគួរសម ចាងហ្វាងព្រះរាជបណ្ណាល័យ បានសួរដូចវត្តឯទៀតលោក អធិការវត្តនេះ ក៏បានសុំឲ្យមានសាលាបង្រៀនទនិងគ្រូបង្រៀនខ្មែរ បង្រៀន បាលី បង្រៀនភាសាបារាំង ចាងហ្វាងព្រះរាជបណ្ណាល័យក៏ពេញចិត្ត ណាស់ រួចបានប្រគេនសៀវភៅនិងរូបផ្ដិតពុម្ព រួចហើយក៏ត្រឡប់មកកាន់ ទីសំណាក់ដើមវិញចំណែកខ្លួនខ្ញុំលោកចៅហ្វាយខណ្ឌ នី បាននិមន្តទៅ ទទួលភត្តកិច្ចឆាន់នៅនាទីផ្ទះឯផ្សារ ១អន្លើនិងឈ្មោះ ដី ផង ។

ដល់ម៉ោង ៦ រសៀល ចេញទៅមុខទៀតបំពោះទៅឯផ្សារបាយធៅ ដើម្បីនឹងចុះកាណូតរបស់លោក ឡាដ់មីនិស្ត្រាទ័របង្ហួសទៅវត្តបឹងទន្យា ក្នុងឃុំសាំងគារ ខណ្ឌាឌុញមី តែកាលដែលដល់ទៅផ្សារបាយធៅ ពួក យួនអ្នកធ្វើការក្នុងកាណូតប្រាប់ថាពេលម៉ោង ២•នេះទៅមិនរួចទេព្រោះទឹក នាច បើដល់ម៉ោង ៤ រសៀល ទើបទឹកជោរល្មមទៅបាន ចាងហ្វាងព្រះ រាជបណ្ណាល័យក៏នឹកស្ដាយពេលដែលខាតដល់ ២ ម៉ោង គួរនឹងត្រឡប់ ទៅវត្តណាសិន ដល់ម៉ោង ៤ សឹមមកចុះកាណូតវិញ ទើបចេញពីបាយ ធៅត្រឡប់ចូលទៅវត្តមហាទព ក្នុងឃុំរ៉ាធំង ខណ្ឌាញីវ៉ា តែមិនជួបនឹង លោកអធិការក៏ចេញមកវិញ ហើយបង្ហួសចូលវត្ត ១ ទៀតឈ្មោះវត្តដីទឹម កណ្ដាល ក្នុងឃុំរ៉ាគឹម ខណ្ឌាញីវ៉ា នៅក្នុងវត្តនោះយូរប្រមាណជា ៣០

មីនុត ក៏ចេញពីវត្តនោះមកវិញឆ្ពោះទៅឯផ្សារបាយនៅទៀត លុះដល់ទឹកជោរល្មមទៅបាន ទើបចុះកាណូតចេញពីបាយនៅទៅ នៅចំនួនប្រមាណ ៣ គីឡូម៉ែត្រទៀតនឹងដល់ទៅវត្តបឹងទន្លា កាណូតនោះក៏គឿងទៅមិនរួច ព្រោះទឹកជោរមិនទាន់ពេញទំហឹង ទើបលោកហៅហ្វយខណ្ឌី ហៅទូកយួន ១ មកចម្លងចុះពីកាណូត ហើយចែវទៅ ទំកំដល់ទៅវត្តបឹងទន្លា វេលាម៉ោង ៦ ល្ងាច ហើយឡើងចូលទៅវត្តបឹងទន្លា ។ នេះកំពុងតែសាងវិហារធ្វើដោយបេតុងអារម៉េ និងប្រក់ក្បឿងពណ៌ មានកំពូលស្រួចទៅលើបុស្បុកជាំរំលេចដោយកញ្ចក់ ទំនងកំពូលខាងលើដូចវិហារវត្តព្រះកែវក្រុងភ្នំពេញ តែសព្វថ្ងៃនេះ ធ្វើមិនទាន់ហើយនៅឡើយ បានសួរទៅលោក ១ ប្រាប់ថាវិហារនេះសាងមក ៥ ឆ្នាំហើយ ឥឡូវទុញភាល់សោហ៊ុយពេក ។ យើងមិនបានចូលទៅមើលខាងក្នុងវិហារនោះឡើយ ព្រោះតិចពេលណាស់ នៅតែខាងមុខកុដិលោក ហើយបានសួរដូចវត្តឯទៀត លោកអធិការវត្តនេះ លោកបេះតែមិនហ៊ានិយាយធ្វើយទំនងជាលោកគិតថា ដែលចាង ហ្វាងព្រះរាជបណ្ណាល័យមកនេះ ដើម្បីនឹងរៀតរៀនដូចម្តេចក៏មិនដឹង ព្រោះជាតិគេជាបារាំងផង ឬ លោកគិតខ្លាចដោយហេតុឯណាមួយក៏មិនដឹង ហើយបានប្រគេនសៀវភៅនិងរូបផ្តិតពុម្ពស្រេចហើយ ក៏ត្រឡប់ចុះមកកំពង់វិញ ទទួលកាណូតក៏ដល់ទៅព្រមគ្នា ទើបចុះកាណូតត្រឡប់មកវិញ ដល់ម៉ោង ៧ កន្លះយប់ បានដល់មកទីសំណាក់ដើមវិញ ។

ដល់វេលាម៉ោង ៨ យប់ លោកចៅហ្វាយស្រុក អិម ១ អន្ទើ នឹងអស់លោកចៅហ្វាយខណ្ឌជាតិជាខ្មែរ បានប្រមូលអស់ពួកខ្មែរដែលកាន់ព្រះពុទ្ធសាសនាឲ្យមកជួបជុំគ្នាក្នុងទីវិហារវត្តឃ្លាំង ហើយបាននិមន្តឲ្យអធិប្បាយពន្យល់ អំពីធម៌វិន័យច្បាប់ព្រះពុទ្ធ អស់ពួកសប្បុរសជើងវត្តឃ្លាំងក្នុងវេលាយប់នោះ លុះអធិប្បាយរួចហើយ ចាងហ្វាងព្រះរាជបណ្ណាល័យក៏ក្រោកឡើងហើយ ឲ្យសព្ទសាធុការ ដល់អស់ពុទ្ធសាសនិកជនទាំងអម្បាលនោះ សូមឲ្យបានសេចក្តីសុខ សេចក្តីចម្រើន ទាំងការធ្វើស្រែចំការក៏ឲ្យបានចម្រើនគ្រប់គ្នា រួចចាងហ្វាងព្រះរាជបណ្ណាល័យ ក៏ត្រឡប់ទៅកាន់ទីសំណាក់វិញ ។

## ដំណើរចេញពីខេត្រស្រុកត្រាំង ថ្ងៃ ២៨ ខែយ៉ុំងវីយេរ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ កន្លះព្រឹក ចេញពីខេត្រឃ្លាំងឆ្ពោះទៅខេត្ររ៉ាច់យ៉ា (ខ្មែរហៅក្រមួនស) អស់ចម្ងាយផ្លូវចំនួន ១៤៨ គីឡូម៉ែត្រដល់ម៉ោង ១១ ជិតថ្ងៃត្រង់ក៏ដល់ទៅរ៉ាច់យ៉ា ហើយចូលទៅឈប់នៅប៉ុយរូលោក ឡាដមីនិស្ត្រាទ័រចំនួន ៣០ មីនុត រួចហួសទៅឯវត្តឧត្តុង្គមានជ័យ ក្នុងឃុំយីហ៊ិងញឹង ខណ្ឌគៀងហារ ចម្ងាយពីប៉ុស្តិ៍ទៅចំនួន ២ គីឡូម៉ែត្រ ខ្លួនខ្ញុំនិងឈ្មោះ ដី បានឈប់អាស្រ័យនៅវត្តឧត្តុង្គមានជ័យនេះ ចំណែកចាងហ្វាងព្រះរាជបណ្ណាល័យទៅឈប់សំណាក់អាស្រ័យទៅផ្ទះបង្គលោ ៗ ចំណែកខ្លួនខ្ញុំដែលនៅសំណាក់អាស្រ័យក្នុងវត្ត ព្រមទាំងលោកគ្រូសូត្រ

លោកមានព្រះទ័យល្អ បានចាត់ចែងទឹកខ្ទះឲ្យសំណាក់អាស្រ័យដោយស្រួលដកបដល់មកវិញ ខ្ញុំមានអំណរគុណលោកមិនភ្លេចឡើយ ។

## ដំណើរក្នុងខែត្រ រ៉ាប់ យ៉ា

វេលាល្ងាចម៉ោង ២ កន្លះក្នុងថ្ងៃជាមួយគ្នា ចាងហ្វាងព្រះរាជបណ្ណាល័យបានអញ្ជើញទៅវត្តឧត្តុង្គមានជ័យ ដែលជាវត្តគឺខ្ញុំសំណាក់មានសេក្រេទែរ យួនម្នាក់ដែលលោក ឡាដមីនិស្រ្តាទ័រ ចាត់ឲ្យជាអ្នកជូនដំណើរបានជូនទៅផង បានចូលទៅជួបជុំនៅទីសាលាវត្តនេះ ព្រោះគេរៀបចំបម្រុងចាំទទួលក្នុងសាលានេះ ក្នុងពេលដែលជួបជុំនោះគឺព្រះសង្ឃនៅក្នុងវត្តនេះ ទាំងអស់មានលោកអធិការនាម ទឹម ជាដើម និង លោកអធិការវត្តអង្គជុំ ព្រមទាំងមន្ត្រីយួននិងខ្មែរ និងបណ្ដាពស្ត្រអ្នកស្រុកស្រីប្រុសមកជួបជុំជាមួយគ្នា ហើយចាងហ្វាងព្រះរាជបណ្ណាល័យបានសួរលោកអធិការទាំងពីរវត្ត តាមទំនងដូចសួរលោកអធិការក្នុងវត្តឯទៀត ៗ លោកអធិការវត្តឧត្តុង្គមានជ័យបានឆ្លើយថា លោកមានត្រូវការចង់ឲ្យមានសាលារៀនក្នុងវត្តលោក នឹងឲ្យមានគ្រូបង្រៀនពីភ្នំពេញ ដើម្បីនឹងបានបង្រៀនចំណេះវិជ្ជាខាងខ្មែរ និងបាលីធម្មវិន័យ និងភាសាបារាំងខ្លះផង លុះរួចកិច្ចសួរនេះហើយ ចាងហ្វាងព្រះរាជបណ្ណាល័យបានប្រគេនសៀវភៅនិងរូបថតពុម្ព ដល់លោកអធិការទាំងពីរវត្តនោះ រួចចូលទៅមើលវិហារ ស្រេចហើយក៏ចេញពីវត្តនោះឆ្ពោះទៅវត្តដែលនៅឆ្ងាយ ៗ

មុនដំបូងឈៀងចូលទៅវត្តអង្គជុំ ១ នេះជាវត្តតូច មិនមានកុដិសាលាមាំមួន ទេ វិហារក៏តូច ជាវត្តស្ថិតនៅកណ្តាលព្រៃត្រែង ចូលទៅតែ ១ រំពេច ក៏ចេញមកវិញ ហើយហួសទៅវត្តកំពង់ចិន និងវត្តក្តាងដំ វត្តទាំងពីរនេះ កាលដែលយើងចូលទៅដល់ ឃើញលោកសង្ឃក្នុងវត្ត កំពុងតែបាត់ចែងរៀបចំចាំទទួលហើយមានចៅហ្វាយខណ្ឌម្នាក់ជាជាតិខ្មែរដែលជាអ្នកត្រួតត្រាខណ្ឌនេះ បានមកក្នុងទីនោះ ហើយដំរាបចាងហ្វាងព្រះរាជបណ្ណាល័យថាខ្ញុំបាទបានដឹងថា លោកស្រីអញ្ជើញមកដល់ក្នុងថ្ងៃស្អែក លោកសង្ឃក្នុងវត្តកំពុងតែរៀបចំចាំទទួលដល់ថ្ងៃស្អែក ឥឡូវអញ្ជើញមកដល់ក្នុងថ្ងៃនេះរៀបទទួលមិនទាន់ ចាងហ្វាងព្រះរាជបណ្ណាល័យឆ្លើយថាមិនបាច់រៀបចំអ្វីទេហើយបានសួរលោកអធិការទាំងពីរវត្តនោះ ព្រមទាំងប្រគេនសៀវភៅនិងរូបថតពុម្ពជូនវត្តឯទៀត រួចហើយចេញអំពីវត្តទាំងពីរនេះ ហួសទៅវត្ត ១ ទៀតឈ្មោះហៅវត្តឃ្លាំងមឿង ចៅហ្វាយខណ្ឌខ្មែរនោះក៏ជូនទៅជាមួយផង កាលដែលទៅដល់ក៏ឃើញវត្តឃ្លាំងមឿងនោះជាវត្តធំមាំមួន លោកអធិការវត្តនេះឈ្មោះជោ មានងារជាព្រះមហាបទុមវង្សា ជាព្រះឧបជ្ឈាយ៍មានសញ្ញាបត្រតាំងពីសម្តេចព្រះមហាសង្ឃរាជ ព្រះនាមទៀង ក្នុងស្រុកខ្មែរ លោកអធិការនោះក៏ចុះមកទទួលជាមួយនឹងលោកអធិការវត្តកំពង់សុរិយា ហើយយើងបានចូលទៅមើលវិហារ ដល់ទៅទីលានដីខាងមុខវិហារ លោកអធិការវត្តនេះ

និយាយនឹងចាងហ្វាងព្រះរាជបណ្ណាល័យថា អាត្មាកំពុងតែរៀបចំបម្រុងចាំទទួលដល់ថ្ងៃស្អែក ឥឡូវអញ្ជើញមកដល់ថ្ងៃនេះ រៀបទទួលមិនទាន់ ចាងហ្វាងព្រះរាជបណ្ណាល័យឆ្លើយថា ខ្ញុំចង់ឃើញតែទីវត្ត ដែលមិនទាន់រៀបចំចាំទទួល ជាងវត្តដែលរៀបចំហើយ ទើបត្រឡប់ពីវិហារឡើងទៅលើកុដិលោក ៗ ក៏រៀបធ្វើបដិសណ្ឋារៈទទួលដោយសមគួរ ហើយបានសួរលោកអធិការវត្តឃ្លាំងមឿង និងវត្តកំពង់សុរិយា ព្រមទាំងប្រគេនសៀវភៅ និងរូបផ្តិតពុម្ពដូចវត្តឯទៀត ៗ លោកគ្រូវត្តឃ្លាំងមឿងបានឆ្លើយថា អាត្មាត្រូវការចង់ឲ្យមានសាលាបង្រៀន និងគ្រូបង្រៀនឲ្យបង្រៀនអក្សរខ្មែរ ព្រះត្រៃបិដក និងអក្សរបារាំងខ្លះផងក្នុងវត្តនេះ ហើយលោកនិយាយតទៅទៀតថា អាត្មារៀបចំបម្រុងចាំទទួលដល់ថ្ងៃស្អែក ឥឡូវអញ្ជើញមកដល់មុន អស់ឧបាសក ឧបាសិកា ជើងវត្តឥតមានអ្នកណាដឹងនឹងមកឲ្យទាន់ក្នុងពេលនេះ ហេតុនេះអាត្មាសូមអញ្ជើញលោកស្រីឲ្យចូលមកវត្តអាត្មាម្តងទៀត ចាងហ្វាងព្រះរាជបណ្ណាល័យ ក៏បានគិតថ្ងៃទៅឃើញថាដល់ថ្ងៃ ៣០ ខែយ៉ាំងវីយេរនេះជាថ្ងៃត្រូវត្រឡប់ពី ក៉ប់យ៉ា ទៅខេត្ត កងជី នឹងមកតាមផ្លូវនេះដែរ ហើយនឹងចូលមកឈប់នៅវត្តនេះវេលាម៉ោង ៨ ព្រឹកដល់ម៉ោង ១២ ថ្ងៃត្រង់សឹមចេញទៅខេត្តកងជី លោកអធិការវត្តឃ្លាំងមឿងលោកក៏ត្រេកអរ ព្រោះនឹងបានសម្រេចតាមសេចក្តីដែលលោកគិតទុក ៗ លុះរួចកិច្ចក្នុងវត្តនេះហើយ ក៏ត្រឡប់មកឯទីសំណាក់ដើមវិញ ៗ

ថ្ងៃ ២៨ ខែយ៉ាំងវីយេរ ឆ្នាំ ១៩២៨

ថ្ងៃនេះបម្រុងនឹងទៅវត្តឡាំងយឿ ក្នុងឃុំយិញឡុក ខណ្ឌថាញ់អៀង ដោយសាលុប-កប៉ាល់តូចរបស់រដ្ឋការ តែចាងហ្វាងព្រះរាជបណ្ណាល័យ គិតថា កុំឲ្យខាតវេលាក្នុងការដែលដើរមើលវត្តនេះ ដោយដឹងថាសាលុបនោះនឹងចេញទៅត្រូវទៅប៉ុស្តិ៍ឡុងមី ផ្លូវរថយន្តក៏ទៅដល់ប៉ុស្តិ៍ឡុងមីនោះដែរ ហើយតាមផ្លូវនោះមានវត្តខ្លះ ទើបឲ្យសាលុបចេញទៅតាមផ្លូវទឹក យើងក៏ចេញទៅដោយរថយន្ត របស់លោកឡាដមីនិស្ត្រាទ័រនៅក៉ច់យ៉ា កាលដែលចេញពីក៉ច់យ៉ាទៅនៅវេលាម៉ោង ៨ ព្រឹក ដល់ទៅវត្តអូរជុំ ក្នុងឃុំអាបឡុក ខណ្ឌគៀងឌិញ វេលាម៉ោង ១០ ព្រឹកហើយ បានចូលទៅក្នុងវត្តនោះ បានសួរនឹងបានប្រគេនសៀវភៅដូចវត្តឯទៀត រួចចេញមកវិញមកឈប់សម្រាកនៅផ្ទះចៅហ្វាយខណ្ឌហាយ ៗ នេះមានងារកេរ្តិ៍យសជាចៅហ្វាយស្រុក ហើយបានទទួលភត្តកិច្ចក្នុងផ្ទះលោកចៅហ្វាយខណ្ឌនេះទាំងអស់គ្នា ។ លុះដល់ម៉ោង ១២ ថ្ងៃត្រង់ ក៏ចេញពីនោះទៅទៀត ដល់ម៉ោង ២ រសៀលបានដល់ទៅប៉ុស្តិ៍ឡុងមី ៗ នេះជាប៉ុស្តិ៍ដេឡេគេ (ទីចៅហ្វាយស្រុក) យួនម្នាក់នៅត្រួតត្រា មានផ្ទះផ្សារក៏ច្រើនគ្រាន់បើ វេលាដែលទៅដល់ឡុងមី មិនទាន់ឃើញសាលុបមកដល់ក៏រង់ចាំសាលុប ចាងហ្វាងព្រះរាជបណ្ណាល័យក៏រង់ចាំនៅលើរថយន្ត ចំណែកខ្លួនខ្ញុំមិនអាចព្រាំនៅលើរថយន្តបានព្រោះមានកំដៅព្រះអាទិត្យខ្លាំង ក៏និយាយនឹងតាហានខ្មែរម្នាក់ឲ្យនាំទៅរកផ្ទះសំណាក់ តាហាននោះក៏នាំ

ទៅរកផ្ទះយួន ១ កាលវេលាដែលខ្ញុំចូលទៅក្នុងផ្ទះនោះ មានតាយួនម្នាក់ ចេះខ្មែរចេះថ្វាយបង្គំស្រួលបួល ហើយរកទឹកតែនិងស្លាប្រគេនឆាន់ ខ្ញុំក៏ សួរទៅតានោះៗ ឆ្លើយថាខ្លួនគាត់ធ្លាប់នៅឯខេត្តព្រះត្រពាំងដើងវត្តពីសី ដែលគាត់មកនេះមកសួរកូនស្រីគាត់ កូនស្រីគាត់នោះមិនចេះខ្មែរទេ លុះ ខ្ញុំអង្គុយបាន ១ ស្របក់ ស្រាប់តែឃើញយាយយួនជាប្រពន្ធតាយួននោះ មកដល់ទៀត ហើយថ្វាយបង្គំសួរសុខទុក្ខ រួចសួរខ្ញុំថាលោកសមុហ អួង ជាសមុហលោកគ្រូវិមលធម្ម សុខសប្បាយទេឬម្តេច ខ្ញុំស្រឡាញ់លោក ដូចកូន រួចសួរថាយាយបាកំង ១ នាក់ដែលជាចាងហ្វាងព្រះរាជបណ្ណា-ល័យនៅ ៗ ភ្នំពេញទេឬទៅឯណាទៅហើយ ព្រោះខ្លួនគាត់បានយក ប្រាក់ ៥ រៀលទៅជូនម្តង តាំងពីឆ្នាំមុនជិត ៤ ឆ្នាំហើយ ទើបឈ្មោះ ដី បង្អុលប្រាប់ថាយាយបាកំងនោះនៅទឹងរទេះឡាន ទើបតានិងយាយ ២ នាក់នោះស្ទុះទៅ១ រំពេចឈ្មោះដី ជាអ្នកនាំទៅបានរៀបកប់ដំកបសព្វគ្រប់ ទើបចាងហ្វាងព្រះរាជបណ្ណាល័យ ក៏ចុះពីរថយន្ត បណ្តើរតានិងយាយ យួននោះចូលទៅក្នុងផ្ទះកូនគាត់ រួចយាយនោះបានយកសំបុត្រប្រគាន់ដៃ កាលដែលជូនប្រាក់៥ រៀលឯក្រុងភ្នំពេញមកបង្ហាញ ទើបចាងហ្វាងព្រះ រាជបណ្ណាល័យនិយាយថា ព្រះរាជបណ្ណាល័យសព្វថ្ងៃនេះ បានចម្រើន ណាស់ហើយ បានបោះពុម្ពសៀវភៅនិងរូបផ្សេងៗ ជាច្រើនដែលបាន ចម្រើនដូច្នេះនេះ គឺដោយអំណាចប្រាក់៥រៀលរបស់យាយនិងតាបានយក ទៅចូលជាដំបូងមុនគេបំផុត និងប្រាក់ចំណូលឯទៀតខ្លះជាដើមអាទ៍នាំ

ឲ្យកើតសេចក្តីចំរើន ទើបបានឲ្យសៀវភៅ២ និងរូបផ្តិតពុម្ព៤សន្លឹកទៅតា និងយាយយួន២នាក់នោះហើយប្រាប់ថានឹងហើយដែលជាផលកើតឡើង អំពីប្រាក់ ៥ រៀល ថាបើមិនបេះមើល ចូរយកទៅប្រគេនលោកគ្រូណា ដែលពេញចិត្តយកបុណ្យទៀតចុះ ហើយយាយនិងតាយួននោះនិយាយថា ខ្ញុំតាំងពីដួចមកពីភ្នំពេញ ខ្ញុំរឭកលោកស្រីមិនឈប់ទេ ទើបចាងហ្វាង ព្រះរាជបណ្ណាល័យឆ្លើយតបទៅវិញថា ខ្ញុំរឭកតានិងយាយណាស់ដែរ ដែលខ្ញុំបានមកជួបនេះគឺដោយអំណាចសេចក្តីរឭកយាយនិងតាទាំងពីរនេះ ឯង នាំបណ្តាលដឹកនាំឲ្យខ្ញុំបានមកជួប ទើបតានិងយាយនោះរឹងរឹតតែ ត្រេកអរជ្រះថ្លាលើកដៃសំពះយ៉ាងញាប់ច្រើនដង ហើយជូនប្រាក់ ១រៀល ទៀត រួចបង្គាប់កូនស្រីគាត់ឲ្យជូន ១ រៀលផងត្រូវជា ២ រៀល ហើយ និយាយថាប្រាក់ ២ រៀលនេះខ្ញុំជូនលោកស្រីពិសាតាមផ្លូវ ចាងហ្វាងព្រះ រាជបណ្ណាល័យក៏និយាយតបទៅវិញថា ប្រាក់ដែលខ្ញុំចាយរាយតាមផ្លូវមិន ខ្វះខាតទេ រាជការបានចេញឲ្យហើយ ឯប្រាក់ ២ រៀលនេះទុកជាថ្លៃ យាយទិញសៀវភៅ ខ្ញុំនឹងផ្ញើសៀវភៅដែលទើបនឹងបោះពុម្ពមកឲ្យ ៗ គ្រប់ថ្លៃ ២ រៀលនេះហើយយកទៅធ្វើបុណ្យទៀតចុះនឹងបានបុណ្យច្រើន ទើបយាយនិងតាយួនពីរនាក់នោះក៏រឹងរឹតតែត្រេកអរណាស់ ទើបថ្វាយបង្គំក៏ រឹងរឹតតែញាប់ដៃឡើងទៀត រួចចាងហ្វាងព្រះរាជបណ្ណាល័យសុំថតរូប យាយនិងតាយួនពីរនាក់នោះព្រមទាំងកូនស្រី ១ ទៀតជា ៣ នាក់រួមជា មួយគ្នា ៗ លុះថតរូបហើយវេលារសៀលជាងម៉ោង ៤ ទទួលសាលុបក៏

ទៅដល់ក្នុងវេលានោះ ទើបយើងនាំគ្នាចុះទៅក្នុងសាលុប ឯរថយន្តដែល ជូនទៅនោះឲ្យត្រឡប់មកក៉ច់យ៉ាវិញ ដល់វេលាម៉ោង ៥ រសៀល ក៏ចេញ សាលុបនោះទៅ ៗ តាមព្រែកដីកចំពោះទៅវត្តឡាំងយឿ ដែលទៅតាម ព្រែកដីកនោះមិនឆ្ងាយប៉ុន្មានក៏ដល់ទៅព្រែកចាស់ ហើយបត់តាមព្រែក នោះទៅ នៅសងខាងព្រែកនោះឃើញសុទ្ធតែដើមចាកដុះប្រកិតជិតគ្នាល្អ មើលណាស់ ខ្ញុំនឹកស្មានថាក្រែងមានអ្នកណាជាម្ចាស់គេបណ្ដុះដាំ ដល់ សួរទៅ សេក្រេទែរ យួនដែលជូនទៅនោះ គេប្រាប់មកវិញថាដើមចាក ទាំងនោះសុទ្ធតែដុះឯងឥតមានអ្នកណាដាំទេ ៗ ទៅនោះរហូតដល់ម៉ោង ៧ យប់ទើបដល់ទៅឡាំងយឿ ហើយចតសាលុបនៅ ៗ ផែមុខផ្ទះបាកាំង កូនកាត់ ១ នាក់ឈ្មោះ ឡារ៉ូ បាកាំងនេះជាអ្នករកស៊ីធ្វើស្រែចម្ការ តាមដែល គេប្រាប់ថាបាកាំងនេះជាអ្នកមានទ្រព្យសម្បត្តិ ឯប្រពន្ធជាជាតិបាកាំងសែស សុទ្ធ ៗ មោនសៀរ ឡារ៉ូ បានអញ្ជើញចាងហ្វាងព្រះរាជបណ្ណាល័យ ឲ្យ ទៅអាស្រ័យដំណេកនៅទីផ្ទះរបស់គេ យើងទាំងអស់គ្នា ដែលទៅជាមួយ នៅអាស្រ័យដំណេកក្នុងសាលុប ៗ

ថ្ងៃ ២៩ ខែយ៉ាំងវីយេ ឆ្នាំ ១៩២៨

វេលាម៉ោង៧ព្រឹក នាំគ្នាចូលទៅឯវត្តឡាំងយឿ ៗនេះ ក៏ជាវត្តធំមាំមួន ដែរ វត្តនេះគេហៅថាវត្តឧត្តមមានជ័យបូរីព្រឹក្សា លោកអធិការវត្តនេះ ឈ្មោះ កយ លោកយកចិត្តទុកដាក់ណាស់ កាលដែលបានដឹងថាចាង ហ្វាងព្រះរាជបណ្ណាល័យទៅដល់ ក៏ចាត់ចែងរៀបចំទទួល ដោយគួរ

សមនៅទីកុដិលោក បានប្រាប់ឧបាសកទាយកជើងវត្ត ឲ្យមកជួបជុំត្រៀបត្រាតាំងពីព្រឹកព្រហាម វេលាដែលជួបជុំស្រេចហើយ ចាន់ហ្វាន់ព្រះរាជបណ្ណាល័យបានសួរជួបវត្តឯទៀត លោកអធិការវត្តនេះបានឆ្លើយថាត្រូវការចង់បានឲ្យមានសាលារៀន ក្នុងវត្តលោក ចង់បានគ្រូលោកសង្ឃមកពីភ្នំពេញ ដើម្បីនឹងបង្រៀនអក្សរខ្មែរ ព្រះត្រៃបិដក និងភាសាបាលីខ្លះ រួចហើយចាន់ហ្វាន់ព្រះរាជបណ្ណាល័យ បានសួរជួបវត្តឯទៀត ហើយប្រគេនសៀវភៅនិងរូបផ្ដិតពុទ្ធ ដល់លោកអធិការវត្តនេះ ហើយផ្ញើសៀវភៅទុកឲ្យប្រគេន លោកវត្តឯទៀតខ្លះផង ដែលនៅជិតខាងគ្នា ព្រោះមិនមានពេលនឹងហួសទៅវត្តឯទៀតៗ រួចត្រឡប់ចុះមកឯសាលុបវិញ លោកអធិការវត្តនេះស្ដាយណាស់ ដោយមិនបាននៅឲ្យយូរបន្តិចក្នុងវត្តលោក ទើបខ្លួនលោកក៏ចុះជូនមកជាមួយ ឲ្យដល់ទៅក៉ច់យ៉ាដល់ម៉ោង៨ព្រឹកក៏ចេញសាលុបពីឡាំងយឿមកវិញ ដល់ម៉ោង៣សៀលទើបដល់មកក៉ច់យ៉ាដល់សៀលម៉ោង៤ លោកសង្ឃមានប្រមាណជាង៤០អង្គព្រមទាំងឧបាសកជាង១០០នាក់ ជួបជុំនៅក្នុងវិហារ វត្តឧត្តុង្គមានជ័យដោយចង់ស្ដាប់រឿងព្រះពុទ្ធសាសានា ខ្ញុំក៏ប្រឹងទៅអធិប្បាយ ពីរឿងព្រះពុទ្ធសាសនា និងធម៌វិន័យក្នុងព្រះពុទ្ធសាសនាខ្លះ ក្នុងទីវត្តនោះចំនួនកន្លះម៉ោងលុះរួចហើយទើបចាន់ហ្វាន់ព្រះរាជបណ្ណាល័យដែលអញ្ជើញទៅក្នុងទីនោះដែរក៏ក្រោកឈរឡើង ហើយនិយាយពន្យល់រំលឹកដាស់តឿនដល់ព្រះភិក្ខុសង្ឃនិងបាសកទាយកទាំងអស់ថា ឲ្យនាំគ្នាប្រតិបត្តិតាមពុទ្ធ

សាសនាឲ្យត្រឹមត្រូវ ដូចសេចក្ដីដែលខ្ញុំអធិប្បាយនេះ ហើយឲ្យពរសព្ទ សាធុការដល់ពពួកបរិស័ទ្យដែលមកជួបជុំព្រមគ្នាក្នុងទីនោះៗ

## ដំណើរចេញពីខេត្តរ៉ាប៉យ៉ាថ្ងៃ ៣ ខែយ៉ាំងវីយេរ ឆ្នាំ១៩២៨

ថ្ងៃនេះជាថ្ងៃត្រូវចេញចំពោះទៅខេត្តកង់ធី ( ខ្មែរហៅព្រែកបុស្សី ) ប៉ុន្តែលោកអធិការវត្តឃ្លាំងមឿងលោកបានអញ្ជើញ បាននិមន្តឲ្យចូលវត្ត លោកតាំងពីថ្ងៃមុន កំណត់ឲ្យចូលទៅវត្តលោកក្នុងថ្ងៃនេះ ហេតុនេះបាន ហ្វាងព្រះរាជបណ្ណាល័យ ក៏ចាត់ការចេញដំណើរពីកប៉យ៉ា នៅវេលា ម៉ោង ៣ ព្រឹក ដល់ម៉ោង ៧ កន្លះក៏ដល់ទៅវត្តឃ្លាំងមឿង លោកអធិ-ការវត្តឃ្លាំងមឿង លោករៀបចំទទួលម្តងនេះ ជាការហ៊ឹកហ៊ាក់មាំទាំ របស់លោកណាស់ ត្រង់ផ្លូវដែលបែកពីថ្នល់ធំចូលទៅវត្តលោក មានក្លោង សៀម ១ វង់ តាំងពីផ្លូវបែកនោះរហូតដល់វត្តលោក មានដាំដងទង់ជាក់ ទង់ជ័យជាជួរតាមផ្លូវរហូតដល់ចូលទៅក្នុងវត្ត ឯក្នុងវត្តទៅទីសាលាមាន លេងក្លោងសៀម ១ វង់ទៀត ខាងក្នុងសាលាមានតុកៅអី ក្រាលដោយ សំពត់ស ហើយចងផ្កាស្រយោនរយាងពីលើ កាលដែលរថយន្តទៅដល់ ផ្លូវបែក គេក៏លេងក្លោងសៀមទទួលដល់ទៅក្នុងទីវត្តក៏មានលេងក្លោងទៀត ព្រមទាំងអុជផាវត្រសូរសន្ធឹកទ្រហឹងអឹងអាប់ ៗ បំណែកលោកសង្ឃដែល និមន្តពីវត្តក្រៅមកនៅចាំទទួលរួមជាមួយនឹងវត្តឃ្លាំងមឿងនេះ គឺវត្តកំពង់ លុ[illegible] ១ វត្តទ្រើងទង ១ ព្រមទាំងបាសកទាយកជាច្រើនមកត្រៀបត្រា

តាំងទូលក្នុងទីសាលា លុះរួចកិច្ចទទួលនេះហើយ ក៏ចាត់ចែងភោជនាហារប្រគេនភិក្ខុសង្ឃ រួចចាត់ចែងអាហារយ៉ាងឧត្តម ជូនចាងហ្វាងព្រះរាជបណ្ណាល័យ លុះដល់រួចភត្តកិច្ចនេះហើយ ព្រះសង្ឃ និងឧបាសក ឧបាសិកា ទាយក ទាយិកា មកជួបជុំព្រមគ្នាក្នុងទីសាលា ខ្ញុំក៏បានអធិប្បាយពីគុណព្រះពុទ្ធសាសនាប្រគេនភិក្ខុសង្ឃព្រមទាំងឧបាសកទាយក ចំនួនកន្លះម៉ោងរួចហើយ ទើបចាងហ្វាងព្រះរាជបណ្ណាល័យបានឲ្យពរសព្វសាធុការដល់ព្រះសង្ឃនិងឧបាសកទាយកទាំងអស់គ្នា ។

ដល់ម៉ោង ១១ កន្លះជិតថ្ងៃត្រង់ក៏ចេញពីវត្តឃ្លាំងមឿងចំពោះទៅខេត្តកងថី ដល់ម៉ោង ២ រសៀលបានដល់ខេត្តកងថី ចាងហ្វាងព្រះរាជបណ្ណាល័យបានឈប់សំណាក់អាស្រ័យនៅ ។ ផ្ទះរាជការ ខ្ញុំនិងឈ្មោះជីទៅសំណាក់នៅផ្ទះហោតិលចិននៅផ្សារកងថី ព្រោះខេត្តនេះមិនមានវត្តលោកសង្ឃខ្មែរនៅជិតប៉ុស្តិ៍ ។

(មានតទៅទៀត)

